# នាម ដ៏មហាប្រពៃ
# របស់អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ

# وَلِلَّهِ ٱلْأَسْمَآءُ ٱلْحُسْنَىٰ

# អ៉ាលិលឡាហ៊ិល-
# អាសស្មាអ៊ុល-ហ៊ុសណា

بِسْمِ اللهِ الرَّحْمٰنِ الرَّحِيمِ

إنَّ الْحَمْدَ للهِ ، نَحْمَدُهُ وَنَسْتَعِينُهُ وَنَسْتَغْفِرُهُ ، وَنَعُوذُ بِاللَّهِ مِنْ شُرُورِ أَنْفُسِنَا وَمِنْ سَيِّئَاتِ أَعْمَالِنَا ، مَنْ يَهْدِهِ اللَّهُ فَلا مُضِلَّ لَهُ ، وَمَنْ يُضلِلْ فَلا هَادِيَ لَهُ ، وَأَشْهَدُ أَنْ لا إِلَهَ إِلا اللَّهُ وَحْدَهُ لا شَرِيكَ لَهُ ، وَأَشْهَدُ أَنَّ مُحَمَّدًا عَبْدُهُ وَرَسُولُهُ :

أما بعد:-

اللّٰهُمَّ لا عِلْمَ لَنَا إِلَّا مَا عَلَّمْتَنَا ، إِنَّكَ أَنْتَ الْعَلِيْمُ الْحَكِيْمُ ، اللّٰهُمَّ عَلِّمْنَا مَا يَنْفَعُنَا وَانْفَعْنَا بِمَا عَلَّمْتَنَا وَزِدْنَا عِلْمًا ، اللّٰهُمَّ أَرِنَا الْحَقَّ حَقًّا وَارْزُقْنَا اتِّبَاعَهُ ، وَأَرِنَا الْبَاطِلَ بَاطِلاً وَارْزُقْنَا اجْتِنَابَهُ ، رَبَّنَا تَقَبَّلْ مِنَّا إِنَّكَ أَنْتَ السَّمِيْعُ الْعَلِيْمُ ، وَتُبْ عَلَيْنَا إِنَّكَ أَنْتَ التَّوَّابُ الرَّحِيْمُ .

السَّلَامُ عَلَيْكُمْ وَرَحْمَةُ اللهِ وَبَرَكَاتُهُ

បងប្អូន សាសនិកអ៊ីស្លាម ទាំងអស់ជាទីគោរពរាប់អាន! នេះគឺជាមេរៀន ដ៏សំខាន់ ជាផ្នែកមួយក្នុងការមានអ៊ីម៉ានចំពោះអល់ឡោះ នោះគឺ មេរៀន អំពី «នាម ឬ ឈ្មោះ របស់អល់ឡោះ ក្រោមពន្លឺនៃគម្ពីរអាល់គួរអាន និងស៊ុណ្ណះ» ។

## គោលបំណងនៃការសិក្សាមេរៀននេះ

១. បង្ហាញដល់បងប្អូនសាសនិកអ៊ីស្លាម នូវការស្គាល់ អល់ឡោះ តាមរយៈការស្គាល់ឈ្មោះ និងលក្ខណៈរបស់ទ្រង់ ក្រោមពន្លឺនៃគួរអាន និងស៊ុណ្ណះដ៏ត្រឹមត្រូវ ។

២. បង្ហាញ នូវ មាគ៌ាដ៏ត្រឹមត្រូវ (អះលីស៊ុណ្ណះ វ៉ាល់ហ្ជើម៉ាអះ) ក្នុងការមានជំនឿចំពោះ អល់ឡោះ ។

៣. ដើម្បី ឲ្យបងប្អូនសាសនិកអ៊ីស្លាមទាំងអស់ ស្គាល់នូវមាគ៌ាដែលមិនត្រឹមត្រូវ ផ្ទុយនឹង មាគ៌ាគួរអាន និងស៊ុណ្ណះ ដើម្បីការពារខ្លួន កុំឲ្យធ្លាក់ចូលក្នុងមាគ៌ាដែលវង្វេងនេះ ។

## សារៈសំខាន់នៃការសិក្សាមេរៀននេះ

១. ការមានចំណេះវិជ្ជា ទាក់ទងនឹងការស្គាល់ អល់ឡោះ ស្គាល់នាម និងលក្ខណៈរបស់ទ្រង់ គឺជាចំណេះវិជ្ជាដ៏វិសេសវិសាលបំផុត ជាចំណេះដឹងដ៏មហាប្រសើរ និងមហាថ្លៃថ្នូរ ។

២. ការស្គាល់អល់ឡោះ នាំមកនូវការស្រឡាញ់ចំពោះទ្រង់ មានការខ្លាចចំពោះទ្រង់ មានការប្រគល់ខ្លួនចំពោះទ្រង់ មានការសង្ឃឹម ចង់បានផលបុណ្យអំពីទ្រង់ ហើយក៏នាំឲ្យ មានចិត្តស្មោះសរ (អៀខឡោស្ស) ក្នុងការធ្វើអ៊ីហ្ពើហ្ពាត់ចំពោះទ្រង់ដែរ ដែលនេះហើយគឺជាសុភមង្គលពិត ។ ហើយគ្មានវិធីណា

ដែលអាចឲ្យស្គាល់អល់ឡោះ سُبْحَانَهُ وَتَعَالَى បានច្បាស់ជាងស្គាល់ឈ្មោះ និងលក្ខណៈ របស់ទ្រង់ឡើយ ។

៣. ការស្គាល់អល់ឡោះ سُبْحَانَهُ وَتَعَالَى នាំឲ្យមាន ការកើនឡើងនៃអ៊ីម៉ាន ។ ពីព្រោះវាជាប្រការមួយ ក្នុងចំណោមប្រការទាំងបីនៃការមាន «តៅហេដ» ចំពោះអល់ឡោះ គឺត្រូវ ៖

ក. តៅហេដរូហ្ពូហ្គីយ៉ះ

ខ. តៅហេដអ៊ូលូហ៊ីយ៉ះ

គ. តៅហេដ អាសស្មាក និងស៊ីហ្វាត ។

អល់ឡោះ មានបន្ទូលថា ៖

﴿ رَّبُّ ٱلسَّمَٰوَٰتِ وَٱلْأَرْضِ وَمَا بَيْنَهُمَا فَٱعْبُدْهُ وَٱصْطَبِرْ لِعِبَٰدَتِهِۦ ۚ هَلْ تَعْلَمُ لَهُۥ سَمِيًّا ﴿٦٥﴾ ﴾ مريم: ٦٥

មានន័យថា ៖

*﴿ ទ្រង់ជាម្ចាស់នៃមេឃជាច្រើនជាន់ និងផែនដី ព្រមទាំងអ្វីៗ ដែលនៅចន្លោះវាទាំងពីរ ។ ដូច្នេះចូរអ្នក (មូហាំម៉ាត់) គោរពសក្ការៈចំពោះទ្រង់ និងត្រូវទ្រាំអត់ធ្មត់ ក្នុងការគោរពសក្ការៈចំពោះទ្រង់ ។ តើអ្នកធ្លាប់ដឹងឬទេថា មានអ្នកដូចទ្រង់? (ពិតជាគ្មានទេ) ﴾*

[ស៊ូរ៉ោះ ម៉ើរយ៉ាំ, អាយ៉ាត់ ៦៥]

﴿ رَّبُّ ٱلسَّمَٰوَٰتِ وَٱلۡأَرۡضِ وَمَا بَيۡنَهُمَا ﴾

បញ្ជាក់ពី រូហ្ហហ្គីយ៉ះ របស់អល់ឡោះ

﴿ فَٱعۡبُدۡهُ وَٱصۡطَبِرۡ لِعِبَٰدَتِهِۦۚ ﴾

បញ្ជាក់ពី អ៊ូលូហ៊ីយ៉ះ របស់អល់ឡោះ

﴿ هَلۡ تَعۡلَمُ لَهُۥ سَمِيّٗا ٦٥ ﴾

បញ្ជាក់ពី អាស្មាក និងស៊ីហ្វាត របស់អល់ឡោះ

## និយមន័យ

ពាក្យ «នាម» ឬ «ឈ្មោះ» ជាពាក្យ ដែលនៅក្នុងភាសាអារ៉ាប់ គេហៅថា «អ៊ិស័ម, អាស្មាក» ។ សាសនវិទូអ៊ីស្លាម បានឲ្យនិយមន័យថា៖ «នាម» របស់អ្វីមួយ គឺជាពាក្យសំដីដែលសម្គាល់លើរបស់នោះ ។

ឯចំណែកពាក្យ «លក្ខណៈ» ដែលនៅក្នុងភាសាអារ៉ាប់ គេហៅថា «ស៊ីហ្វាត» វិញ, គឺជានាមដែលបញ្ជាក់ពីស្ថានភាពនៃអ្វីមួយ វាគឺជាសញ្ញាដែលនៅជាប់នឹងម្ចាស់វា ដែលនាំឲ្យគេស្គាល់ម្ចាស់នោះដោយសារតែវា ។

លោក អ៊ិបនូ ហ្វារីស (ជាសាសនាវិទូអ៊ីស្លាមមួយរូបឯកទេសផ្នែកភាសាវិទ្យា) បានឲ្យនិយមន័យថា៖ «ស៊ីហ្វាត» គឺជាសញ្ញាសម្គាល់ដែលនៅជាប់នឹងអ្វីមួយ ។

យោងតាម គណៈកម្មការអចិន្ត្រៃយ៍ នៃប្រទេសអារ៉ាប់សាអ៊ូឌីបានសរសេរថា ៖

«នាម» ឬ «ឈ្មោះ» របស់អល់ឡោះ គឺរាល់អ្វីដែលបញ្ជាក់អំពី «ហ្សាត» របស់អល់ឡោះ ជាមួយគ្នានោះដែរ វាបញ្ជាក់អំពីលក្ខណៈ (ស៊ីហ្វាត) ដ៏មហាពេញលេញរបស់ អល់ឡោះ ដែលទ្រង់មាន ដូចជា៖ «អាល់-ក៏ហ្វៀរ», «អាល់-អាលីម», «អាល់-ហាគីម», «អ័ស-សាមៀក», «អាល់-ហ្កើស្សៀរ», ទាំងនេះ គឺជានាមដែលបញ្ជាក់

អំពី «ហេវ្ទីត» របស់អល់ឡោះ និងបញ្ជាក់ពីអ្វីដែល «ហេវ្ទីត» នោះ មាន នូវ ចំណេះដឹង (អ៊ិលមូ), គតិបណ្ឌិត (ហ៊ិកម៉ាត់), ការឮ និង ការឃើញ ។ រីឯ «ស៊ីហ្វាត» វិញ គឺជាលក្ខណៈដ៏មហាពេញលេញ ដែលមានលើ «ហេវ្ទីត» នោះ ដូចជា អ៊ិលមូ, ហ៊ិកម៉ាត់, ការឮ, និង ការឃើញ។ ដូច្នេះ «អាសស្មាក» (នាម) បញ្ជាក់ឲ្យ ២ ប្រការ រីឯ «ស៊ីហ្វាត» (លក្ខណៈ) វិញ បញ្ជាក់តែមួយប្រការប៉ុណ្ណោះ ។

## រូបមន្ត មួយចំនួន ដែលត្រូវអនុវត្ត ក្នុងការមាន «អ៊ីម៉ាន» ចំពោះ នាមរបស់អល់ឡោះ

ដើម្បីតម្រង់ទិសឲ្យបានត្រឹមត្រូវ ក្នុងការមានជំនឿចំពោះនាមរបស់ អល់ឡោះ និងដើម្បីឲ្យគេចផុតពីការវង្វេង សាសនវិទូអ៊ីស្លាមបានចងក្រងនូវរូបមន្តមួយចំនួន ក្នុងការមានជំនឿនេះ ។

### *រូបមន្ត ទីមួយ ៖*

បណ្ដានាមរបស់ អល់ឡោះ ទាំងអស់ គឺសុទ្ធជានាមដ៏មហាបរិសុទ្ធ មហាថ្លៃថ្លា និង មហាប្រពៃ មហាខ្ពង់ខ្ពស់។

អល់ឡោះ មានបន្ទូលបញ្ជាក់ពីបញ្ហានេះ ចំនួន ៤ កន្លែង នៅក្នុងគួរអាន ៖

ទី ១ ៖ នៅក្នុងស៊ូរ៉ោះ អាល់-អាក់រ៉ហ្វ ៖

قَالَ تَعَالَى: ﴿ وَلِلَّهِ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰ فَٱدۡعُوهُ بِهَاۖ وَذَرُواْ ٱلَّذِينَ يُلۡحِدُونَ فِيٓ أَسۡمَٰٓئِهِۦۚ سَيُجۡزَوۡنَ مَا كَانُواْ يَعۡمَلُونَ ١٨٠ ﴾ الأعراف: ١٨٠

មានន័យថា ៖

*﴿ ជាកម្មសិទ្ធិរបស់ អល់ឡោះ បណ្ដាឈ្មោះ ដ៏ល្អប្រពៃ ។ ដូច្នេះចូរពួកអ្នកបួងសួងសុំទ្រង់ តាមរយៈឈ្មោះទាំងនោះចុះ។ ហើយចូរពួកអ្នក បោះបង់ចោលពួកដែលកែប្រែនូវ*

បណ្ដាឈ្មោះរបស់ទ្រង់។ ពួកគេនឹងត្រូវគេតបស្នងនូវអ្វី ដែលពួកគេបានប្រព្រឹត្ត ។ ﴾

[ស៊ូរ៉ោះ អាល់-អាក់រ៉ហ្វ ( ១៨០ )]

ទី ២ ៖ នៅក្នុងស៊ូរ៉ោះ អាល់-អ៊ិសរ៉ក ៖

قَالَ تَعَالَىٰ: ﴿ قُلِ ٱدْعُوا۟ ٱللَّهَ أَوِ ٱدْعُوا۟ ٱلرَّحْمَٰنَ ۖ أَيًّا مَّا تَدْعُوا۟ فَلَهُ ٱلْأَسْمَآءُ ٱلْحُسْنَىٰ ۚ وَلَا تَجْهَرْ بِصَلَاتِكَ وَلَا تُخَافِتْ بِهَا وَٱبْتَغِ بَيْنَ ذَٰلِكَ سَبِيلًا ﴿١١٠﴾ ﴾

الإسراء: ١١٠

មានន័យថា ៖

﴿ (ឱមូហាំម៉ាត់!) ចូរពោល (ទៅកាន់ពួកមូស្ហរីគីន) ចុះថា ៖ ចូរពួកអ្នកបួងសួងសុំអំពីអល់ឡោះ ឬពួកអ្នកបួងសួងសុំពីម្ចាស់ «អោរ-រ៉ោះម៉ាន» ដ៏មហាសប្បុរស ។ ក្នុងឈ្មោះមួយណា ក៏ដោយដែលពួកអ្នកបួងសួងសុំចំពោះទ្រង់ គឺសុទ្ធតែជាឈ្មោះ ដ៏ឧត្តុង្គឧត្តមទាំងអស់ ។ ﴾

[ស៊ូរ៉ោះ អាល់អ៊ិសរ៉ក ( ១១០ )]

ទី ៣ ៖ នៅក្នុងស៊ូរ៉ោះ ត្ហហ៊ា ៖

قَالَ تَعَالَىٰ: ﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ۖ لَهُ ٱلْأَسْمَآءُ ٱلْحُسْنَىٰ ﴿٨﴾ ﴾ طه: ٨

មានន័យថា ៖

﴾ *អល់ឡោះ គឺជាម្ចាស់ ដែលគ្មានម្ចាស់ណាផ្សេងត្រូវគេគោរពសក្ការៈដ៏ពិតប្រាកដក្រៅពីទ្រង់ឡើយ ។ ទ្រង់មានឈ្មោះ ជាច្រើន ដ៏ល្អប្រពៃ ។* ﴿ [ស៊ូរ៉ោះ ត្វហា (៨)]

ទី ៤ ៖ នៅក្នុងស៊ូរ៉ោះ អាល់-ហ័ស្ហរ ៖

قَالَ تَعَالَىٰ: ﴿ هُوَ ٱللَّهُ ٱلۡخَٰلِقُ ٱلۡبَارِئُ ٱلۡمُصَوِّرُۖ لَهُ ٱلۡأَسۡمَآءُ ٱلۡحُسۡنَىٰۚ ﴾ الحشر: ٢٤

មានន័យថា ៖

﴾ *ទ្រង់ គឺអល់ឡោះ ជាម្ចាស់ ដែលជាអ្នកបង្កើត ជាអ្នកធ្វើឲ្យមានរូបរាង ។ ទ្រង់ មាននាមជាច្រើនដ៏ល្អប្រពៃ ។* ﴿

[ស៊ូរ៉ោះ អាល់ហ័ស្ហរ (២៤)]

នាមរបស់ អល់ឡោះ ទាំងអស់ សុទ្ធជានាមដ៏មហាបរិសុទ្ធ មហាប្រពៃ មហាឧត្តុង្គឧត្តម ដោយសារ នាមរបស់ទ្រង់ ទាំងអស់ជានាមសម្គាល់ទ្រង់ផង និងបានបញ្ជាក់នូវអត្ថន័យនៃ «ស៊ីហ្វាត» (លក្ខណៈ) របស់ទ្រង់ ដ៏មហាពេញលេញ មហាគ្រប់គ្រាន់ មហាបរិបូណ៌ ផង ។

## រូបមន្ត ទីពីរ ៖

បណ្ដានាមរបស់ អល់ឡោះ ទាំងអស់ ជានាមសម្រាប់សម្គាល់បញ្ជាក់ពីវត្តមានរបស់ទ្រង់ បញ្ជាក់ពី «ហ្សាត» របស់ទ្រង់ (ذات) ដែលជាម្ចាស់នៃនាមនោះ និងបានបញ្ជាក់ពីលក្ខណៈ (صفات) របស់ទ្រង់ផងដែរ ។

ឧទាហរណ៍ ៖ ដូចជានាម «អាល់-ហៃយ» (الحَيّ), «អាល់-អាលីម» (العليم), «អាល់-កហ្ទៀរ» (القدير), «អស់-សាមៀក» (السميع), «អាល់-ហ្ពើសៀរ» (البصير), «អោរ-រ៉ោះម៉ាន» (الرحمن), «អោរ-រ៉ហ៊ីម» (الرحيم), ជាដើម នាមទាំងអស់នេះ ជានាមសម្គាល់លើម្ចាស់តែមួយ គឺ អល់ឡោះ سُبْحَانَهُ وَتَعَالَى ។ តែអត្ថន័យនៃនាមនីមួយៗ ខុសគ្នា ហើយវាបញ្ជាក់ពីលក្ខណៈ ដ៏មហាបរិសុទ្ធ មហាឧត្តុង្គឧត្តម របស់អល់ឡោះ ជាម្ចាស់ ដោយគ្មានខ្វះចន្លោះ និងគ្មានគូរប្រដូច ។

អល់ឡោះ មានបន្ទូលថា ៖

قَالَ تَعَالَىٰ: ﴿ وَهُوَ ٱلْغَفُورُ ٱلرَّحِيمُ ﴿٨﴾ ﴾ الأحقاف: ٨

មានន័យថា ៖

﴿ *ហើយទ្រង់ មហាអភ័យទោស មហាអាណិតស្រឡាញ់* ﴾

[ស៊ូរ៉ោះ អាល់-អះកហ្វ ( ៨ )]

قَالَ تَعَالَىٰ: ﴿ وَرَبُّكَ ٱلْغَفُورُ ذُو ٱلرَّحْمَةِ ﴾ الكهف: ٥٨

មានន័យថា ៖

﴿ *ហើយម្ចាស់របស់អ្នក គឺមហាអភ័យទោស មានក្ដីមេត្តាករុណា។* ﴾,[ស៊ូរ៉ោះ អាល់-កះហ្វី (៥៨)]

## រូបមន្ត ទីបី ៖

ការកំណត់ នាមរបស់អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ ទាំងអស់ ត្រូវធ្វើត្រឹមអ្វីដែលមានបញ្ជាក់ក្នុងគម្ពីរគួរអាន ឬ ក្នុងស៊ុណ្ណះតែប៉ុណ្ណោះ (التوقيفية) ។ នាមណាមួយ ដែលមានបញ្ជាក់ក្នុងគួរអាន ឬស៊ុណ្ណះ ថាជានាមរបស់ អល់ឡោះ យើងទទួលស្គាល់ថា វាគឺជានាមរបស់អល់ឡោះ ដោយគ្មានការបន្ថែម ឬបន្ថយឡើយ។ តែប្រសិនបើគ្មានភស្តុតាងបញ្ជាក់ក្នុងគួរអាន ឬស៊ុណ្ណះទេ យើងមិនអាចសន្មតបានថា ជានាមរបស់អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ ឡើយ ។

ដូច្នេះ យើងមិនអាចកំណត់ឈ្មោះរបស់អល់ឡោះ ដោយការប្រើគំនិតរបស់យើងបានឡើយ ពីព្រោះគំនិតរបស់មនុស្ស ដែលជាម៉ឺខ្លូកនេះ (ជាភាវៈដែលត្រូវគេបង្កើត) មិនអាចគិតដល់ឡើយ អ្វីដែលសាកសមជាមួយនឹង អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ ដែលជាអ្នកបង្កើត

បានឡើយ (الخالق)។ ម្យ៉ាងវិញទៀត ការកំណត់នាមរបស់អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ ដោយខ្លួនឯងគឺជាការបំពានសិទ្ធិដ៏ធំបំផុត ។

អល់ឡោះ មានបន្ទូលថា ៖

قَالَ تَعَالَىٰ: ﴿ وَلَا تَقْفُ مَا لَيْسَ لَكَ بِهِۦ عِلْمٌ ۚ إِنَّ ٱلسَّمْعَ وَٱلْبَصَرَ وَٱلْفُؤَادَ كُلُّ أُو۟لَٰٓئِكَ كَانَ عَنْهُ مَسْـُٔولًا ﴿٣٦﴾ ﴾ الإسراء: ٣٦

មានន័យថា ៖

*﴿ (ឱមនុស្សលោក!) ចូរកុំនិយាយអ្វីដែលអ្នកមិនបានដឹង ។ ពិតប្រាកដណាស់ ត្រចៀក និង ភ្នែក ហើយនិងចិត្តទាំងអស់នោះ នឹងត្រូវគេសួរអំពីវា ។ ﴾*

[ស៊ូរ៉ោះ អាល់-អ៊ិសរ៉ក ( ៣៦ )]

អល់ឡោះ មានបន្ទូលក្នុងអាយ៉ាត់ផ្សេងទៀតថា ៖

قَالَ تَعَالَىٰ: ﴿ قُلْ إِنَّمَا حَرَّمَ رَبِّىَ ٱلْفَوَٰحِشَ مَا ظَهَرَ مِنْهَا وَمَا بَطَنَ وَٱلْإِثْمَ وَٱلْبَغْىَ بِغَيْرِ ٱلْحَقِّ وَأَن تُشْرِكُوا۟ بِٱللَّهِ مَا لَمْ يُنَزِّلْ بِهِۦ سُلْطَٰنًا وَأَن تَقُولُوا۟ عَلَى ٱللَّهِ مَا لَا تَعْلَمُونَ ﴿٣٣﴾ ﴾ الأعراف: ٣٣

មានន័យថា ៖

﴿ (ឱមូហាំម៉ាត់!) ចូរពោលថា ៖ តាមពិតម្ចាស់របស់ខ្ញុំបាន ហាមឃាត់ពីការប្រព្រឹត្តអំពើអាក្រក់ទាំងឡាយ ទោះបីជា ការត្រដាង ឬការលាក់បាំងក៏ដោយ ។ ហើយ (ទ្រង់បាន ហាមឃាត់ទៀត) អំពីការប្រព្រឹត្តបាបកម្ម និងការបំពាន ខុសការពិត ហើយនិងកុំឲ្យពួកអ្នកធ្វើស្ហ៊ីរិកនឹងអល់ឡោះ នូវអ្វីដែលទ្រង់មិនបានបញ្ចុះភស្តុតាងមក។ ហើយពួកអ្នក កុំនិយាយបំផ្លើសចំពោះ អល់ឡោះ នូវអ្វីដែលពួកអ្នកមិន ដឹង ។ ﴾

[ស៊ូរ៉ោះ អាល់អ៊ិសរ៉ក ( ៣៦ )]

## ចំនួននៃនាមរបស់អល់ឡោះ سُبۡحَانَهُۥ وَتَعَالَىٰ

នាមរបស់អល់ឡោះ سُبۡحَانَهُۥ وَتَعَالَىٰ មានចំនួនច្រើន ដែលមិនអាចកំណត់បាន ដោយសារមាននាម ដែលគ្មាននរណាម្នាក់ដឹង ជាច្រើនទៀត ដែលអល់ឡោះ មិនបានបញ្ជាក់ប្រាប់ ។

ភស្តុតាងបញ្ជាក់ពីចំណុចនេះ គឺ ហាហ្ទីស ស្ឈហេហ៍ មួយដែលណាហ្ពី صَلَّى ٱللَّهُ عَلَيۡهِ وَسَلَّمَ បានសូត្រថា ៖

« أَسْأَلُكَ بِكُلِّ اسْمٍ هُوَ لَكَ ، سَمَّيْتَ بِهِ نَفْسَكَ أَوْ عَلَّمْتَهُ أَحَدًا مِنْ خَلْقِكَ ، أَوْ أَنْزَلْتَهُ فِي كِتَابِكَ أَوِ اسْتَأْثَرْتَ بِهِ فِي عِلْمِ الْغَيْبِ عِنْدَكَ ».

[ رواه أحمد ، وابن حبان وصححه ، والحاكم ، وصححه أحمد شاكر في تعليقه على المسند ، وصححه الألباني في الصحيحة ]

មានន័យថា ៖

«ខ្ញុំសុំពីទ្រង់ តាមរយៈរាល់នាមទាំងឡាយរបស់ទ្រង់ ដែលទ្រង់បានដាក់នាមទាំងនោះដោយខ្លួនទ្រង់ផ្ទាល់ ឬ (នាមទាំងឡាយ) ដែលទ្រង់បានបញ្ចុះមកក្នុងគម្ពីររបស់ទ្រង់ ឬ (នាមទាំងឡាយ) ដែលទ្រង់បានបង្រៀននរណាម្នាក់ ក្នុងចំណោមខ្ញុំបម្រើរបស់ទ្រង់ ឬនាមដែលទ្រង់បានថែរក្សាវាទុក នៅក្នុងការដឹងនូវរឿងអាថ៌កំបាំងរបស់ទ្រង់ដែលទ្រង់មាន ។ »

យោងតាមហាហ្ទីសខាងលើ នាមរបស់អល់ឡោះ ដែលទ្រង់បានដាក់នាមដោយផ្ទាល់ ត្រូវបានចែកជា ៣ ក្រុម ៖ មួយក្រុម ជានាមដែលទ្រង់បានបង្រៀនដល់នរណាម្នាក់ ក្នុងចំណោម ម៉ឺខ្លូករបស់ទ្រង់ មួយក្រុមទៀតជានាមដែលទ្រង់បានបញ្ចុះមកក្នុងគម្ពីររបស់ទ្រង់ និងក្រុមទីបី ជានាមដែលទ្រង់ទុកជាអាថ៌កំបាំង ដែលគ្មាននរណាម្នាក់បានដឹង ។

ឯចំណែក ខ្លឹមសារនៃហាហ្ទីស ដែលមានសេចក្តីថា ៖

عَنْ أَبِي هُرَيْرَةَ رَضِيَ اللَّهُ عَنْهُ أَنَّ رَسُولَ اللَّهِ صَلَّى اللَّهُ عَلَيْهِ وَسَلَّمَ قَالَ : « **إِنَّ لِلَّهِ تِسْعَةً وَتِسْعِينَ اسْمًا ، مِائَةً إِلا وَاحِدًا ، مَنْ أَحْصَاهَا دَخَلَ الْجَنَّةَ** » .

[ روى البخاري (2736) ومسلم (2677) ]

មានន័យថា ៖ « *ពិតណាស់អល់ឡោះ មាននាមចំនួន ៩៩, គឺ ១០០ ខ្វះមួយ, នរណាដែលបានរាប់ចេះចាំវា (أَحْصَاهَا) នឹងបានចូលឋានសួគ៌* » ។

សេចក្តីរាយការណ៍ ហាហ្ទីស ខាងលើនេះ មិនមែនបានសេចក្តីថា នាមរបស់ អល់ឡោះ មានចំនួន ត្រឹមតែ ៩៩ នោះទេ ក៏ប៉ុន្តែមានន័យថា អល់ឡោះ បានកំណត់យកចំនួន ៩៩ ឈ្មោះ សម្រាប់ឲ្យខ្ញុំបម្រើរបស់ទ្រង់ទាំងអស់ សិក្សាអំពីវា ដើម្បីទទួលបានផលបុណ្យដ៏មហាប្រសើរ ដែលទ្រង់បានរៀបចំឲ្យសម្រាប់បុគ្គលនោះ គឺការចូលឋានសួគ៌ ។ រឿងនេះ ដូចរឿងបុគ្គលម្នាក់គាត់បាននិយាយ

ថា ៖  ខ្ញុំមានលុយ ១០០០០ រៀលសម្រាប់ធ្វើសប្បុរសធម៌, វាមិនមែនមានន័យថា គាត់មានតែត្រឹម ១០០០០ រៀលនោះទេ តែគាត់នៅមានជាច្រើនទៀតដែលគាត់មិនបានប្រាប់ ។  អ៊ីមុាំ អាន់ណាវ៉ាវី رَحِمَهُ اللَّهُ បាននិយាយថា ៖

اتَّفَقَ الْعُلَمَـاء عَلَى أَنَّ هَـذَا الْحَـدِيثَ لَـيْسَ فِيـهِ حَصْرٌ لأَسْـمَائِهِ سُبْحَانه وَتَعَالَى ، فَلَـيْسَ مَعْنَـاهُ : أَنَّـهُ لَـيْسَ لَهُ أَسْـمَاء غَـيْر هَـذِهِ التِّسْـعَة وَالتِّسْـعِينَ ، وَإِنَّمَـا مَقْصُـود الْحَـدِيث أَنَّ هَـذِهِ التِّسْـعَة وَالتِّسْعِينَ مَنْ أَحْصَاهَا دَخَلَ الْجَنَّة ، فَالْمُرَاد الإِخْبَـار عَـنْ دُخُـول الْجَنَّة بِإِحْصَائِهَا لا الإِخْبَار بِحَصْرِ الأَسْمَاء اهـ.

មានន័យថា ៖ *បណ្ដាអ៊ូឡាម៉ាក បានបញ្ចេញទស្សនៈដូចគ្នាថា ហាហ្ទីសមួយនេះ មិនបញ្ជាក់ពីការកំណត់ចំនួននៃនាមរបស់អល់ឡោះ នោះទេ។ វាមិនមានន័យថា ៖ ទ្រង់គ្មាននាមផ្សេងក្រៅពីនាម ៩៩ នោះទេ។ ក៏ប៉ុន្តែអត្ថន័យនៃ ហាហ្ទីស នេះ គឺនាមចំនួន ៩៩ នេះ សម្រាប់អ្នកដែលបានរាប់, ចេះ, និងចាំវា នឹងបានចូលឋានសួគ៌។ ដូច្នេះគោលបំណងនៃ ហាហ្ទីស គឺ ការប្រាប់ពីដំណឹងនៃការចូលឋានសួគ៌ ដោយសារការរាប់ចេះចាំនាមទាំងនោះ មិនមែនការប្រាប់ដំណឹងពីការកំណត់ចំនួនត្រឹមប៉ុណ្ណឹងនោះទេ ។*

## **អត្ថន័យនៃពាក្យ «អះស៏រ» (أَحْصَى) ក្នុងហាហ្ទីសខាងលើ ៖**

ពាក្យ «អះស៊្ស» នៅក្នុងហាហ្ទីសខាងលើ មិនមែនគ្រាន់តែជាការទន្ទេញចាំស្ទាត់ប៉ុណ្ណោះនោះទេ តែវារួមមានបីលំដាប់ ៖

១. ចេះចាំស្ទាត់ នូវនាមទាំងនោះ

២. យល់ច្បាស់នូវខ្លឹមសារនៃនាមទាំងនោះ

៣. អនុវត្តនូវការគោរពសក្ការៈ (ធ្វើអ៊ីហ្ពាហ្ទាត់) ចំពោះអល់ឡោះ سُبْحَانَهُ وَتَعَالَى ទៅតាមខ្លឹមសារនៃនាមទាំងនោះ និងសុំហ្ទូអាអំពីអល់ឡោះ ដោយប្រើនូវនាមទាំងនោះឲ្យស្របតាមខ្លឹមសារនៃការសុំនោះ ។

ដូចជា នាមរបស់ អល់ឡោះ «អាល់-អាហ័ទ» មានន័យថា តែមួយគត់។ ដូច្នេះ នៅពេលគេដឹងថាទ្រង់តែមួយគត់ជាម្ចាស់ ទ្រង់តែមួយគត់ជាអ្នកដែលត្រូវគោរពសក្ការៈ គេនឹងមិនធ្វើអ្វីមួយដែលជាប្រការ «ស្ទ៊ីរិក» ឬប៉ះពាល់នឹង «តៅហេទ» ឡើយ ។

ដូចជា នាមរបស់អល់ឡោះ «អោរ-រ័ហ្សហ្សាក» មានន័យថា អ្នកផ្តល់លាភសក្ការៈ (រីហ្សគី) ដូច្នេះគេនឹងមិនសុំការផ្តល់ រីហ្សគី អំពីអ្នកផ្សេងឡើយ ។

ដូចជា នាម «អោរ-រ៉ហ៊ីម» មានន័យថា អ្នកដែលប្រកបដោយក្តីមេត្តាករុណា ដូច្នេះ គេនឹងប្រឹងប្រែងធ្វើរាល់អំពើល្អដែលនាំឲ្យទទួលបានក្តីមេត្តាករុណានេះពីទ្រង់ ។

ចំណែកការសុំហ្ទូអាដោយប្រើនាមទាំងនេះវិញ គឺ ការជ្រើសរើសនាម ដែលមានន័យស្របនឹងខ្លឹមសារនៃការសុំនោះ ដូចជាគេចង់សុំការសណ្ដោស និងការប្រទាននូវក្ដីមេត្តាករុណាពី អល់ឡោះ គេហៅទ្រង់ដោយប្រើនាម «អោរ-រ៉ហុីម» គឺ «យ៉ា រ៉ហុីម!» ។ ឬគេចង់សុំការប្រទាន រីហ្សគី ពី អល់ឡោះ គេហៅទ្រង់ដោយប្រើនាមរបស់ទ្រង់ «អោរ-រ៉ហ្សហ្សៀក» គឺ «យ៉ា រ៉ហ្សហ្សៀក!» ។

## ការកំណត់នាម ៩៩ របស់អល់ឡោះ سُبْحَانَهُ وَتَعَالَىٰ ៖

ក្នុងការកំណត់នាមឲ្យបានចំនួន ៩៩, អ៊ូឡាម៉ាកអ៊ីស្លាម មានការខ្វែងយោបល់គ្នាយ៉ាងច្រើន ដោយសារតែហាហ្ទីសដែលរៀបរាប់នាមរបស់ អល់ឡោះ ចំនួន ៩៩ នេះ គឺជា «ហាហ្ទីស-ហ្ទអ៊ីហ្វ» (ខ្សោយ) វាមិនមែនប្រសាសន៍របស់ណាហ្ពី صَلَّى ٱللَّٰهُ عَلَيْهِ وَسَلَّمَ ពិតនោះទេ ។

ដូច្នេះ ហាហ្ទីស នេះ គេមិនអាចយកមកប្រើធ្វើជាភស្តុតាងបានឡើយ ។ នេះជាទស្សនៈរបស់ អ៊ូឡាម៉ាក ហាហ្ទីស ជាច្រើន ។ អ៊ីម៉ាំ អ៊ិបនូ-ហាហ្ជើរ رَحِمَهُ ٱللَّٰهُ បានបកស្រាយ នូវចំណុចខ្សោយរបស់ហាហ្ទីស នេះ យ៉ាងក្បោះក្បាយនៅក្នុងសៀវភៅឯកសារហាហ្ទីសរបស់គាត់ ឈ្មោះ «ហ្វាត់ហ៊ុលហ្បើរី» ពន្យល់សៀវភៅកំណត់ត្រាហាហ្ទីស របស់អ៊ីម៉ាំ អាល់-ហ្ពូខរី ។

នៅពេលគ្មាន ភស្តុតាងណាមួយបញ្ជាក់ច្បាស់លាស់ ក្នុងការរាប់នាមរបស់អល់ឡោះ ចំនួន ៩៩, ទើបបណ្ឌិតអ៊ូឡាម៉ាកអ៊ីស្លាមបានខិតខំស្រាវជ្រាវរាប់នាមរបស់អល់ឡោះ ដែលមានបញ្ជាក់នៅក្នុងគួរអាន និងស៊ុណ្ណះ ដើម្បីធ្វើការអធិប្បាយខ្លឹមសារនៃនាមរបស់ទ្រង់ ។ តែក្នុងការរាប់នាមទាំងនេះ បណ្ឌិត អ៊ូឡាម៉ាក មានការខ្វែងគំនិតគ្នាក្នុងការកំណត់នាមរបស់អល់ឡោះ។

ការខ្វែងគំនិតគ្នានេះដោយសារតែរបៀបនៃការរាប់នោះ ដោយការរាប់នោះត្រូវពឹងលើ រូបមន្តក្នុងការកំណត់នាម ហើយក្នុងការកំណត់រូបមន្តនោះ ពួកគាត់មានការយល់ខុសៗគ្នា ដូច្នេះហើយទើបមានការខ្វែងគ្នាលើការកំណត់នាមខ្លះ ដោយមានអ្នកខ្លះថាជានាមរបស់អល់ឡោះ ហើយអ្នកខ្លះទៀតក៏ថាមិនមែនជានាមទេ ។

ដូចជា នាម ៖ (ذو الجلال والإكرام) ، (نور السماوات والأرض) ، (فاطر السماوات والأرض) ، (بديع السماوات والأرض) ។

## មាគ៌ាមិនត្រឹមត្រូវ ក្នុងការមាន អ៊ីម៉ាន ចំពោះនាមរបស់ អល់ឡោះ

ការដឹងអំពីកំហុសឆ្គងមួយចំនួន ដែលបានកើតមានឡើង ក្នុងការមាន អ៊ីម៉ាន ចំពោះនាមរបស់អល់ឡោះ មានសារៈសំខាន់ខ្លាំងណាស់ ពីព្រោះ វាជាគ្រឹះសំខាន់នៃការមានអ៊ីម៉ានចំពោះ អល់ឡោះ ដែលជាម្ចាស់របស់យើង ដូច្នេះកំហុសទាក់ទងនឹងរឿងនេះ មិនដូចកំហុសក្នុងរឿងផ្សេងទេ ។ ក្រៅពីមាគ៌ាគួរអាន និងស៊ុណ្ណះ (ដូចបានរៀបរាប់ខាងលើ) គឺជាមាគ៌ាវង្វេង ជាមាគ៌ាមិនត្រឹមត្រូវ ព្រោះមនុស្សមិនអាចកំណត់ដោយចិត្តខ្លួនឯង នូវអ្វីដែលជាកម្មសិទ្ធិរបស់អល់ឡោះបានឡើយ ។ តើគេអាចទៅដល់គោលដៅបានយ៉ាងដូចម្តេច ដោយគ្មានការចង្អុលបង្ហាញអំពី ណាហ្គីមូហាំម៉ាត់ ﷺ ដែលជារ៉សូល (អ្នកនាំសារ) របស់អល់ឡោះ ។

ខាងក្រោមនេះជាការលើកឡើងនូវកំហុសមួយចំនួន ទាក់ទងនឹងការមានអ៊ីម៉ានចំពោះនាមរបស់អល់ឡោះ ៖

១. មានការយល់ច្រឡំថា ៖ នាមរបស់ អល់ឡោះនីមួយៗ អាចព្យាបាលមុខជំងឺ មួយចំនួន ច្បាស់លាស់ ។ ដូចជាការនិយាយថា៖ នាមមួយនេះត្រូវនឹងជំងឺនេះ នាមមួយនោះត្រូវនឹងជំងឺនោះ។

ការធ្វើបែបនេះ គឺ ជាការធ្វើខុស, កំហុសរបស់វាមានពីរធំៗ ៖

**ទី ១ ៖** នាំមនុស្សឲ្យធ្វើនូវទង្វើ ដែលគ្មាននៅក្នុងច្បាប់ ។

**ទី ២ ៖** ធ្វើឲ្យមនុស្សរវល់នឹងទង្វើមួយនេះ ដោយមិនបានយកចិត្តទុកដាក់នឹងការ ហ្សីកៀរ និងការព្យាបាល ដោយប្រើមធ្យោបាយដែលស្របនឹងការណែនាំ ក្នុងគួរអាន និងស៊ុណ្ណះ ។

២. ការយកនាមរបស់អល់ឡោះ ទៅសរសេរធ្វើជាយ័ន្តការពារ ដោយដាក់ព្យួរក្នុងឡាន ឬកន្លែងណាផ្សេងទៀត ក្នុងគោលបំណងការពារអំពីប្រការអាក្រក់ផ្សេងៗ ។ នេះជាកំហុសដ៏ធំ ច្បាប់ (នៅក្នុងគួរអាន និងស៊ុណ្ណះ) មិនបានកំណត់ឲ្យធ្វើដូច្នោះឡើយ ផ្ទុយទៅវិញ ច្បាប់បានហាមឃាត់អំពីទង្វើមួយនេះ ។

ណាហ្គី ﷺ បានមានប្រសាសន៍ថា ៖

«مَنْ تَعَلَّقَ تَمِيْمَةً فَلَا أَتَمَّ اللهُ لَهُ» ، [رواه أحمد والحاكم] [1] .

មានន័យថា:

*«ជនណាបានពឹងពាក់នឹង តាមីម៉ះ អល់ឡោះ និងមិនបំពេញ បំណងឲ្យគេឡើយ»*

[រីវ៉ាយ៉ាត់ អះម៉ាត់ និង អាល់-ហាគិម]

---

(1) مسند أحمد (4/ 154) ، ومستدرك الحاكم (4/ 240) ، وصححه الحاكم ووافقه الذهبي .

៣. ជាការធ្វើខុសដែរ គឺ ការសរសេរនាមរបស់ អល់ឡោះ ដាក់លើផ្ទាំងក្រដាស ឬក្រណាត់ ដើម្បីលម្អជញ្ជាំង ឬអ្វីមួយផ្សេងទៀត ដែលនាំឲ្យអ្នកមើលឃើញ គេកោតសរសើរចំពោះការតុបតែង ចំពោះការឆ្លាក់ក្បាច់លម្អនៃផ្ទាំងនោះតែប៉ុណ្ណោះ វាគ្មានបានផ្ដល់ផលប្រយោជន៍អ្វីមួយដល់គេឡើយ ហើយវាក៏មិននាំឲ្យមានការកើនឡើងនៃអ៊ីម៉ានអ្វីដែរ ឬក៏ជំរុញទឹកចិត្តឲ្យគេបង្កើនការធ្វើ អ៊ីហ្គ្លី-ហ្មាត់ ចំពោះ អល់ឡោះ ដែរ ពីព្រោះវាជាការប្រើវិធីដែលច្បាប់មិនបានកំណត់ ។

៤. ជាការធ្វើខុសដែរ គឺការយកនាមរបស់អល់ឡោះ ទាំង ៩៩ មកសូត្រជាប្រចាំ ពេលព្រឹក និងពេលល្ងាច ឬមួយសូត្រនៅពេលផ្សេង ឬមួយកំណត់នាមណាមួយដើម្បីសូត្រ ក្នុងពេលមួយកំណត់ ក្នុងចំនួនកំណត់មួយ ដោយគិតថា ទាំងនេះជាខ្លឹមសារនៃពាក្យ «អះស៊្ស» ក្នុងហាហ្ទីសដែលបានលើកមកខាងលើ ។

៥. ជាការធ្វើខុសដែរ គឺការយល់ថា រាល់នាមរបស់អល់ឡោះ ទាំងអស់មានចំណុចអាថ៌កំបាំង គ្មាននរណាដឹងឡើយ គឺមានតែមនុស្សពិសេសមួយចំនួន ។ ហើយមានអ្នកខ្លះយល់ថា គេ

បានដឹងនូវនាមពិសេសរបស់ អល់ឡោះ ដែលអាចឲ្យគេដឹងនូវរឿងអាថ៌កំបាំង ឬនាំឲ្យគេក្លាយជាមនុស្សពិសេស ។

៦. ជាការធ្វើខុសដែរ គឺ ការដាក់ឈ្មោះកូនចៅ ដោយប្រើពាក្យ «អាប់ឌូ» ជាមួយ នាមផ្សេង ពីនាមរបស់អល់ឡោះ ។ ដូចជា ការដាក់ឈ្មោះថា ៖ អាប់ឌុន-ណាប៊្លី, អាប់ឌុល-កាក់ហ្ពះ, អាប់ឌុល-ហូសេន, ឬនាមផ្សេងទៀតដែលស្រដៀងគ្នានេះ ។

៧. ជាការធ្វើខុសដែរ គឺការយកនាមរបស់អល់ឡោះ មកប្រើលើអ្នកផ្សេង ឬក៏ការយកខ្លឹមសារនៃនាមនោះ មកបញ្ជាក់លើអ្នកផ្សេងដូចជាការបញ្ជាក់ថា ៖ ណាប៊្លី មូហាំម៉ាត់ «អាល់-អៅវ៉ាល់» និង «អាល់- អាឃៀរ», មូហាំម៉ាត់ «អ័ហ្ស-ហ្ស័រហៀរ៍» និង «អាល់-ហ្គើទិន» ។

៨. ជាការធ្វើខុសដែរ គឺ ការយកក្រដាសដែលមានសរសេរនាមរបស់ អល់ឡោះ បោះចោលផ្តេសផ្តាសក្នុងធុងសំរាម ឬកន្លែងមិនសមរម្យ ពីព្រោះ នេះគឺជាការមិនយកចិត្តទុកដាក់ ឬមិនឲ្យតម្លៃចំពោះនាមរបស់អល់ឡោះ ។

៩. ជាការធ្វើខុសដែរ គឺ ការហ្សីកៀរ ចំពោះអល់ឡោះ ដោយការសូត្រ នាមរបស់អល់ឡោះ តែមួយ ដូចជា ការសូត្រថា ៖ «អល់-ឡោះ, អល់ឡោះ» ឬ «ហុក, ហុក» ។

ឬការហ្សីកៀរចំពោះអល់ឡោះ ដោយការរំឭកហៅនាមរបស់អល់ឡោះ ដោយនាមតែមួយគត់ ដូចជា ការសូត្រថា ៖ «យ៉ា-អល់ឡោះ», «យ៉ា-ឡាទីហ្វ», «យ៉ា-ហ្គហ្វូរ» ។

## ការអធិប្បាយ អំពីនាម ៩៩ របស់អល់ឡោះ

ខាងក្រោមនេះ ជាការលើកយកនាមរបស់អល់ឡោះ ចំនួន ៩៩ ដែលមានបញ្ជាក់នៅក្នុងគម្ពីរគួរអាន និងស៊ុណ្ណះដ៏ត្រឹមត្រូវមកអធិប្បាយ ដោយមានភ្ជាប់មកជាមួយនូវភស្តុតាងអំពីគួរអាន និង ស៊ុណ្ណះច្បាស់លាស់ផងដែរ ។

ក្នុងការរាប់នាមរបស់អល់ឡោះ سُبْحَانَهُ وَتَعَالَى ទាំង ៩៩ នេះ គឺជាការរាប់របស់ ស្ហេខ មូហាំម៉ាត់ ហ្ពិន ស្សទ្បេហ៍ អាល់-អ៊ូសៃមីន (الشيخ محمد بن صالح العثيمين) នៅក្នុងសៀវភៅរបស់គាត់ ឈ្មោះ ៖ «អាល់កវ៉ាអ៊ីហ្ទុលមុសឡា» (القواعد المُثلى) ដែលគាត់បានខិតខំស្រាវជ្រាវ គឺ មាននាមចំនួន ៨១ ដកស្រង់ចេញពីក្នុងគម្ពីរគួរអាន និងនាមចំនួន ១៨ ទៀត ដកស្រង់ចេញពីស៊ុណ្ណះដែលត្រឹមត្រូវ។

តែនេះមិនមែនមានន័យថា ក្រៅពីនាមដែលបានរៀបរាប់ក្នុងនេះ មិនមែនជានាមរបស់អល់ឡោះនោះទេ គឺនៅមាននាមផ្សេងទៀត ដែលមានភស្តុតាងបញ្ជាក់ដូចគ្នាដែរ ។

## នាមដែលមានបញ្ជាក់ក្នុងគម្ពីរអាល់-គួរអាន

នាមដែលមានបញ្ជាក់ក្នុងអាល់-គួរអាន ដែលយើងនឹងលើកយកមកបកស្រាយមានចំនួន ៨១ ៖

اللهُ .1

នាម «អល់ឡោះ» ជានាមមួយ ដែលក្លាយចេញមកពីពាក្យដើម «អាល់-អ៊ីឡាហ៍» (الإله) ។ «អាល់-អ៊ីឡាហ៍» មានន័យថាជាព្រះដែលគេគោរពសក្ការៈ ។

ដូច្នេះនាមនេះ បញ្ជាក់ថា អល់ឡោះ គឺជាព្រះជាម្ចាស់ ដែលពិតប្រាកដ ដូច្នេះក្នុងនាមជាខ្ញុំបម្រើរបស់ទ្រង់ ត្រូវគោរពសក្ការៈចំពោះទ្រង់ ត្រូវខ្លាចចំពោះទ្រង់តែមួយគត់ ។ ការសុំហ្វូអា (ការបួងសួង) ការសុំអភ័យទោស ការសុំជំនួយ ការសុំការការពារ ការសុំនូវរីហ្សគី ការប្រគល់ខ្លួន ពឹងផ្អែក និងប្រការផ្សេងៗទៀត ដែលជាអ៊ីហ្ពើហ្វាត់ ត្រូវតម្រង់ឆ្ពោះទៅចំពោះអល់ឡោះតែមួយគត់ ។ នាម «អល់ឡោះ» ជានាម ដែលប្រមូលផ្តុំរួម នូវលក្ខណៈដែលមាននៅក្នុងនាម និងស៊ីហ្វាតរបស់អល់ឡោះ ទាំងអស់ ។

នាម «អល់ឡោះ» មានរំលឹកនៅក្នុង អាល់-គួរអាន ចំនួន ១៧៦២ ដង ។ អល់ឡោះ បានប្រើនាមនេះ ដើម្បីជាការចាប់ផ្តើមនៃអាយ៉ាត់ ចំនួន ៣៣ អាយ៉ាត់ ។

ដូចជា ៖

قَالَ تَعَالَىٰ: ﴿ ٱللَّهُ لَآ إِلَٰهَ إِلَّا هُوَ ٱلۡحَيُّ ٱلۡقَيُّومُۚ ﴾ البقرة: ٢٥٥

មានន័យថា ៖

﴿ ទ្រង់ គឺ អល់ឡោះ ដែលគ្មានទេម្ចាស់ដែលត្រូវគោរពដ៏ពិតប្រាកដក្រៅពីទ្រង់ ។ ទ្រង់ រស់ជាអមតៈ និងជាអ្នកគ្រប់គ្រង ។ ﴾ [ស៊ូរ៉ោះ អាល់ហ្ពើក៏រ៉ោះ (២៥៥)]

## 2. الأَحَدُ

«អាល់-អាហ័ទ» មានន័យថា តែមួយគត់ ។

ដូច្នេះនាមនេះ បញ្ជាក់ថា អល់ឡោះ តែមួយគត់ដែលជាម្ចាស់ ទ្រង់តែមួយគត់ គឺជាស្តេចគ្រប់គ្រង ទ្រង់តែមួយគត់ គឺជាអ្នកចាត់ចែងរៀបចំអ្វីៗទាំងអស់ ដែលកើតមាន ទ្រង់តែមួយគត់ គឺជាអ្នកបង្កើត ហើយទ្រង់តែមួយគត់ ជាព្រះដែលគេគោរពពិតប្រាកដ ដោយគ្មានដៃគូចូលរួម។ ហើយទ្រង់តែមួយគត់ ដែលមាននាម និងមានស៊ីហ្វាត ដ៏មហាថ្លៃថ្លា មហាខ្ពង់ខ្ពស់ មហាប្រពៃ មហាឧត្តុង្គឧត្តម ដោយគ្មានអ្វីមួយប្រដូចនឹងទ្រង់ឡើយ ។

នាមនេះ មានរំលឹក ក្នុងអាល់-គួរអានតែម្តងគត់ ។

قَالَ تَعَالَى: ﴿ قُلْ هُوَ ٱللَّهُ أَحَدٌ ۝١ ﴾ الإخلاص: ١

មានន័យថា ៖ ﴿ *(ឱមូហាំម៉ាត់!) ចូរអ្នកពោលថា ៖ អល់ឡោះ គឺជាម្ចាស់តែមួយគត់ ។* ﴾ [ស៊ូរ៉ោះ អាល់ហ្គើក៏រ៉ោះ (២៥៥)]

### 3. الأَعْلَى

នាម «អាល់-អាក់ឡា» មានន័យថា មហាខ្ពង់ខ្ពស់បំផុត មហាឧត្តុង្គឧត្តម។

អល់ឡោះ មហាខ្ពង់ខ្ពស់ ក្នុងគ្រប់រូបភាព មហាឧត្តុង្គឧត្តម ទ្រង់មហាខ្លាំងពូកែ ដោយគ្មានគូប្រៀប ហើយទ្រង់ស្ថិតនៅទីខ្ពស់ជាងអ្វីៗទាំងអស់ ដោយគ្មានអ្វីមួយខ្ពស់ស្មើ ។

ដូច្នេះ ភាពខ្ពង់ខ្ពស់ របស់អល់ឡោះ سُبْحَانَهُ وَتَعَالَى មានបី ៖

- (علو القدر) កិត្តិយស និង ឋានៈស័ក្ត របស់ទ្រង់ គឺទ្រង់មហាខ្ពង់ខ្ពស់ មហាឧត្តុង្គឧត្តម ។ នាម និងលក្ខណៈរបស់ទ្រង់ ខ្ពង់ខ្ពស់មហាប្រពៃ មហាថ្លៃថ្លា លើសអ្វីៗទាំងអស់ ហើយក៏គ្មានអ្វីប្រដូចនឹងទ្រង់ដែរ ។
- (علو القهر) ឫទ្ធិអំណាច និងភាពខ្លាំងពូកែ របស់ទ្រង់ គឺទ្រង់មហាខ្លាំងពូកែ គ្មានអ្នកខ្លាំងស្មើទ្រង់ឡើយ ម៉ឺខ្លួកទាំងអស់ សុទ្ធតែស្ថិតក្រោមអំណាចរបស់ទ្រង់ គ្មានអ្វីមួយដែលកម្រើក ឬក៏ស្ងៀម សុទ្ធតែស្ថិតក្រោម ការចង់របស់ទ្រង់ ។
- (علو الذات) ហ្សាត របស់ទ្រង់ គឺ ទ្រង់ស្ថិតនៅទីដ៏ខ្ពស់ខ្ពស់ជាងអ្វីៗទាំងពួង ទ្រង់ស្ថិតនៅលើ «អារ៉ស្ហ» របស់ទ្រង់។ ការស្ថិតនៅ (អ៊ិសតាវ៉ា) លើ «អារ៉ស្ហ» របស់អល់-ឡោះ سُبْحَانَهُ وَتَعَالَى គឺជាការបញ្ជាក់ប្រាប់របស់ទ្រង់។ ទ្រង់